www.yerngshare.blogspot.com

គម្រោងបណ្តាញបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប

( TSTD — TA 7305-CAM )

# បច្ចេកទេសដាំដំណាំ

# សណ្តែកកួរ



ខែ សីហា ឆ្នាំ ២០១៣

www.telecentercambodia.org/

# អារម្ភកថា

គម្រោងបង្ហាញបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប (TSTD) ជាគម្រោងជំនួយ បច្ចេកទេស ដែលផ្តល់សហ-ហិរញ្ញប្បទានឥតសំណងសម្រាប់អនុវត្ត ដោយរដ្ឋាភិបាលហ្វាំងឡង់ មូលនិធិដៃគូអ៊ី-អាស៊ី និង ចែករំលែកពុទ្ធិនៃសាធារណៈរដ្ឋកូរ៉េ និង ធនាគារអភិវឌ្ឍន៍អាស៊ី (អេឌីប៊ី) ។ រាជរដ្ឋាភិបាលកម្ពុជា ចូលរួមបដិភាគមិន មែនជាថវិកា (ធនធានមនុស្ស ការិយាល័យបំពេញការងារ...) សម្រាប់អនុវត្តគម្រោង។ ធនាគារអភិវឌ្ឍន៍អាស៊ី ជាអ្នក ចាត់ចែងប្រតិបត្តិការផ្ទាល់ ជំនួសមុខឲ្យម្ចាស់ជំនួយ ។ គម្រោង កំពុងធ្វើការសាក ល្បងបង្ហាញបច្ចេកវិទ្យាកសិកម្ម និង ផ្តល់សេវាព័ត៌មានជនបទ ដើម្បីបង្កើន និង ពង្រីកប្រាក់ប្រភពចំណូលរបស់គ្រួសារកសិករខ្នាតតូច ក្នុងខេត្ត កំពង់ចាម កំពង់ធំ សៀមរាប និង បន្ទាយមានជ័យ។

គម្រោងបានអនុវត្តកម្មវិធីធ្វើបង្ហាញបច្ចេកវិទ្យាផលិតកម្មដំណាំបន្លែ ក្នុង ខេត្តកំពង់ចាម និង ខេត្តកំពង់ធំ ដោយសហការជាមួយ ក្រុមហ៊ុនគ្រាប់ពូជបន្លែ អ៊ីស្តវេស្ទ៍ស៊ីដ អ៊ិនធើណេសិនណល (East West Seed International) ក្នុងរូបភាពកិច្ចសហការភាពជាដៃគូរសាធារណៈ-ឯកជន ។ អ្នកបច្ចេកទេសរបស់ក្រុមហ៊ុន បាន សហការជាមួយមន្ត្រីកសិកម្ម នៅតាមមូលដ្ឋានក្នុងខេត្តទាំងពីរ បានអនុវត្តកម្មវិធីធ្វើបង្ហាញ និងបណ្តុះបណ្តាល បច្ចេកទេសផលិតកម្មបន្លែ ដោយប្រើវិធីសាស្ត្របង្រៀនឱ្យធ្វើអនុវត្តជាក់ស្តែង (សាលារៀនបន្លែកសិករ) ជាជំហានៗ តាមដំណាក់កាលលូតលាស់ ពេញមួយវដ្តដំណាំ។

សៀវភៅណែនាំបច្ចេកទេសសម្រាប់កសិករ ស្តីពី ***បច្ចេកទេសដាំសណ្តែកគួរ*** នេះ បានរៀបចំឡើងដើម្បី ផ្តល់នូវចំណេះដឹង និង ចំណេះធ្វើជាក់ស្តែង ដល់គ្រួសារកសិករ ស្តីពី ការដាំដំណាំនេះ តាមបច្ចេកទេសថ្មី ដែលអាច ដាំបានគ្រប់រដូវ ពេញមួយឆ្នាំ។ បច្ចេកទេសថ្មីនេះ ជួយគ្រួសារកសិករ ឲ្យមានប្រភពចំណូលថ្មី ជាប្រចាំបន្ថែមមួយ ទៀត ដោយប្រើប្រាស់ឱ្យកាន់តែអស់លទ្ធភាពនូវធនធានដី-ទឹក និង ធនធានផ្សេងទៀតដែលគ្រួសារមាន ។

ខ្លឹមសារក្នុងសៀវភៅណែនាំបច្ចេកទេសសម្រាប់កសិករនេះ បានរៀបចំឡើងដោយក្រុមអ្នកបច្ចេកទេសអនុវត្ត របស់ក្រុមហ៊ុនគ្រាប់ពូជបន្លែ អ៊ីស្តវ៉េស្ទ៍ស៊ីដ សម្រាប់កសិករ ដោយផ្អែកលើជំហានអនុវត្តជាក់ស្តែង និង បទពិសោធន៍ ទទួលបានជោគជ័យក្នុងការដាំដំណាំនេះ រយៈពេលពីររដូវកន្លងមក នៅក្នុងខេត្តទាំងពីរ ។ ក្នុងការរៀបឯកសារនេះ មានការចូលរួមយ៉ាងសកម្ម ក្នុងការផ្តល់គំនិត និង ការសម្រួល និងបន្ថែមខ្លឹមសារបច្ចេកទេស ក៏ដូចជា ផ្នែករចនាបថ សរសេរ និង ប្រាស្រ័យទាក់ទងផ្សព្វផ្សាយ ការកត់ត្រាសំរាប់គ្រប់គ្រងកសិដ្ឋាន និង វិភាគសេដ្ឋកិច្ចផលិតកម្ម របស់ លោក **លីវ លាងហ៊ី** ប្រធានក្រុមទីប្រឹក្សាគម្រោង និង អ្នកជំនាញផ្នែកផ្ទេរ និង ផ្សព្វផ្សាយបច្ចេកវិទ្យា។

ការអនុវត្តន៍កម្មវិធីធ្វើបង្ហាញ និងបណ្តុះបណ្តាល ស្តីពី ***ការដាំដំណាំសណ្តែកគួរ*** តាមបច្ចេកទេសថ្មីនេះ អាច ទទួលបានជោគជ័យ ដោយសារមានការគាំទ្រជាប់ជាបន្តពី ថ្នាក់ដឹកនាំ និង បុគ្គលិកក្រុមទីប្រឹក្សាគម្រោង ពី លោក **ប្រាក់ ថាវអមិដា** ប្រធានសម្របសម្រួលគម្រោង TSTD និង ជាអគ្គលេខាធិការរង នៃក្រសួងកសិកម្ម រុក្ខាប្រមាញ់ និង នេសាទ និង ពីមន្ទីរកសិកម្មខេត្ត ទាំងពីរ។

ខែ សីហា ឆ្នាំ ២០១៣

**ទំនាក់ទំនងព័ត៌មានបន្ថែម**

លោក លីវ លាងហ៊ី — ប្រធានក្រុមទីប្រឹក្សា / អ្នកជំនាញផ្នែកផ្ទេរ និង ផ្សព្វផ្សាយបច្ចេកវិទ្យា នៃគម្រោង TSTD

អ៊ីម៉ែល : livleanghy@gmail.com

## ១. ការលើករង



- សំអាតដីចំការ និង រើសស្មៅចេញឱ្យអស់
- ភ្ជួរ រាស់ដីឲ្យបានម៉ដ្ឋល្អ ហើយហាលឱ្យបានពី១០ទៅ១៥ថ្ងៃ ។
- ភ្ជួរដី (គោក្របី ឬ គោយន្ត) ជម្រៅពី ១៥ ទៅ ២០ សង់ទីម៉ែត្រ។

**ការលើករងដាំ:**

- ទទឹងៈ ១ ម៉ែត្រ និងបណ្តោយទៅតាមលទ្ធភាពដី តែមិនគួរឲ្យលើសពី ១៥ ម៉ែត្រ ដែលធ្វើឲ្យពិបាកក្នុងការថែទាំ ដូចជា ស្រោចទឹក ដកស្មៅជាដើម។
- ចន្លោះរងៈ ពីរងមួយទៅរងមួយ អាចមានចន្លោះ ០,៥ម៉ែត្រ
- កំពស់ៈ នៅរដូវប្រាំង រងមានកំពស់ ពី២០ ទៅ ៣០សង់ទីម៉ែត្រ ហើយរដូវវស្សា កំពស់ពី ៣០ ទៅ ៥០ សង់ទីម៉ែត្រ
- ដាក់លាមកសត្វស្ងួត ឬ ដីកំប៉ុស្តិ៍ ចំនួនពី១ ទៅ ២គីឡូក្រាម ក្នុងផ្ទៃដីរង១ម៉ែត្រការ៉េ កប់ទ្រាប់បាតរង ដោយច្របល់វាឲ្យសព្វល្អជាមួយដីរង។ (*សូមមើលតារាងប្រើប្រាស់ជី នៅទំព័រខាងមុខ*)
- គ្របរងៈ ធ្វើបានពីរប្រភេទ ដើម្បីទប់ស្កាត់ការហូរច្រោះរង ការពារសំណើមដី កាត់បន្ថយការដុះស្មៅ។

### ក. ធ្វើរងប្រើប្លាស្ទិចគ្របដី


១. ផ្ទៃប្លាស្ទិចពណ៌ទឹកប្រាក់ ដាក់ខាងលើ


២. ប្រើបន្ទះឬស្សីស្តើង ដែលមានមុខស្រួចសំរាប់ខ្ទាស់ជើងរងប្លាស្ទិច


៣. ដោតបន្ទះឬស្សី នៅសងខាងជើងរងប្រវែងពី១៥ ទៅ២០សង់ទីម៉ែត្រ


៤.យកដីសង្កត់ជើងរងសងខាង


៥.ចោះរណ្តៅដោយប្រើកំប៉ុងក្តៅ

១. ប្រើខ្សែទាញតំរង់ ដើម្បីចោះរណ្តៅដាំកូន និងប្រើខ្នាតសំរាប់ចោះរណ្តៅ ពីគុម្ពមួយ ទៅគុម្ពមួយ

២. ប្រើកំប៉ុងក្តៅ សំរាប់ចោះរណ្តៅ

៣. រៀបចំទ្រើងសំណាញ់ ឬ កូនឈើឲ្យហើយមុនដាំកូន-គ្រាប់ ឬ បន្ទាប់ពីដាំកូន-គ្រាប់ ហើយមិនឲ្យយឺតជាង៧ថ្ងៃ

## ខ. លើករងប្រើចំបើងគ្រប






## ២. ការដាំសណ្តែកដោយបណ្តុះគ្រាប់មុនដាំ

### ២.១. ការធ្វើរានបណ្តុះកូន

ការធ្វើរោងបណ្តុះកូនបន្លែ គឺអាចធ្វើឱ្យគ្រាប់ដុះបានល្អ  កាត់បន្ថយការរលួយកូន  និង អាចការពារកូនដំណាំបានពីការឆ្លងជម្ងឺពី សត្វល្អិតចង្រៃ (ដែលមកយាយីកូនដំណាំ)។ រោងបណ្តុះកូនបន្លែ អាចធ្វើតាមទំហំខាងក្រោម៖

- ដំបូលសំរាប់គ្របរានៈ កំពស់ ពី១,៨ ទៅ ២ម៉ែត្រ ដើម្បីងាយស្រួលចេញចូលថែទាំកូន
- កំពស់រានៈ ពី ០,៨ ទៅ ១ ម៉ែត្រ ពីដី
- ទទឹងរានៈ ពី ០,៨ ទៅ ១ម៉ែត្រ
- មានដំបូលការពារទឹកភ្លៀង និងសំណាញ់ការពារពន្លឺថ្ងៃ (ជាការប្រសើរ  ប្រើសំណាញ់មានពណ៌បៃតង)
- មានជញ្ជាំងធ្វើពីសំណាញ់មុង ការពារសត្វល្អិត។



## ២.២. ការរៀបចំដីបណ្តុះ

- យកដីមានជីជាតិ ១ ភាគលាយជាមួយជីលាមកគោស្ងួត ឬជីកំប៉ុស្តិ៍ ២ ភាគ និង ផេះអង្កាម ពី ៣ ទៅ ៤ភាគ (ផេះអង្កាមត្រូវត្រាំទឹក រយៈពេលពី ២ ទៅ ៤យប់)
- យកល្បាយដែលបានលាយច្របល់គ្នាឱ្យសព្វ ហើយយកទៅលីងរហូតក្តៅសព្វទាំងអស់ ។

**ផលប្រយោជន៍នៃការលាយល្បាយដីសម្រាប់បណ្តុះកូន គឺ ៖**

- គ្រាប់ងាយដុះ ឬសដុះលូតលាស់ល្អ
- កូនបន្លែស្រូបយកជីជាតិបានគ្រប់គ្រាន់
- សម្លាប់មេរោគ (ជម្ងឺ) ដែលបង្កឲ្យកូនបន្លែរលួយ
- សម្លាប់គ្រាប់ស្មៅចង្រៃ ដែលដុះដណ្តើមយកជីពីកូនបន្លែ
- សម្លាប់ពងសត្វល្អិត និង សត្វល្អិតចង្រៃក្នុងដីដែលបំផ្លាញគ្រាប់បន្លែ




- យកល្បាយដីដែលលីងហើយ ទុកឲ្យត្រជាក់សិន ទើបដាក់ក្នុងកន្ទោង ឬ ថាសបណ្តុះ

យកដីបណ្តុះលីង ហើយដាក់កន្ទោង ឬ ថាសបណ្តុះ



## ២.៣. ការរៀបចំបណ្តុះគ្រាប់សណ្តែកកួរ

- ត្រូវរៀបចំបណ្តុះគ្រាប់ ព្រមជាមួយគ្នានឹងការលើករងដាំ
- ការបណ្តុះគ្រាប់សណ្តែកកួរ
  - យកគ្រាប់១គ្រាប់ដាក់បណ្តុះផ្ទាល់ក្នុង ១ កន្ទោង ឬ ១ រន្ធថាសបណ្តុះ ដែលបានដាក់ដីហើយ។
  - រោយដីស្តើងៗពីលើគ្រាប់
  - ស្រោចទឹកឲ្យជោគ ទើបយកថាស ឬ កន្ទោងដាក់គ្រាប់ ហើយដាក់ក្នុងរោងបណ្តុះកូន។
  - ស្រោចទឹករៀងរាល់ពេលព្រឹកឲ្យជោគល្មម (អាចពី១ ទៅ ២ ដងក្នុង១ថ្ងៃ អាស្រ័យតាមស្ថានភាពដី) បើសិនដីស្ងួតពេក អាចធ្វើឲ្យគ្រាប់មិនដុះ។


១. ដាក់គ្រាប់ក្នុងថាសបណ្តុះ

## ២.៤. ការដាំកូនសណ្តែកកួរ

បន្ទាប់ពីគ្រាប់ដុះបាន៣ថ្ងៃ យើងត្រូវពង្រឹងកូនសណ្តែកសិន មុននឹងយកទៅដាំ (ដោយដាក់កូនសណ្តែក ឲ្យត្រូវពន្លឺថ្ងៃ ហើយកាត់បន្ថយការស្រោចទឹករយៈពេល ៣-៤ថ្ងៃ) ។

៣. យកថាសបណ្តុះដាក់ក្នុងរោងបណ្តុះកូន ហើយស្រោចទឹកឲ្យបានទៀងទាត់។



២. រោយដីបណ្តុះពីលើគ្រាប់ ទើបស្រោចទឹក

ការពង្រឹងកូនបែបនេះ នឹងជួយឲ្យកូនសណ្តែករឹងមាំល្អ បន្ទាប់ពីដាំហើយ (គឺ មិនអន់ ស្រពោន បន្ទាប់ពីដាំ) ។ កូនសណ្តែកអាយុ ចន្លោះ ពី៦ ទៅ ៨ថ្ងៃ បន្ទាប់ពីបណ្តុះគ្រាប់ហើយ អាចយកដាំបាន។





- ដាក់ជីគីមីតាមរណ្តៅ រួចច្របល់ជាមួយដីឲ្យសព្វ ។ (*បើបានដាក់ជីមុនពេលគ្របប្លាស្ទិចហើយ  មិនចាំបាច់ដាក់ជីនេះ ថែមទៀតទេ*)





- បញ្ចូលលទឹកតាមចន្លោះរងដាំគ្របប្លាស្ទិច (បើស្រោចដោយដៃក្នុងរណ្តៅរងគ្របប្លាស្ទិច  អាចបណ្តាលឲ្យកូនបន្លែស្លោកស្រពោន) ឬ ស្រោចទឹកលើរង ដែលគ្របចំបើង ។
- ដាំកូនសណ្តែកក្ងួរនៅពេលរសៀល
- របៀបដកកូនបន្លែចេញពីថាសបណ្តុះ  គឺ  យកម្រាមដៃ រុញបាតថាសឡើងលើ   ហើយដៃម្ខាងទៀតដកកូនសណ្តែកក្ងួរថ្នមៗ  ដើម្បីកុំឲ្យដាច់ឬស។

យកម្រាមដៃរុញបាតថាស  ហើយដៃម្ខាងទៀតទាញ
ដកគល់កូនដំណាំ






- ដាក់ថ្នាំពុលកសិកម្ម ដាយណូតឺហ្វុយរ៉ាន់( Dinotefuran)  មុនពេលដាំ  ចំនួន ២ក្រាម ក្នុង ១ រណ្តៅ។ យើងអាចដាក់មុន ឬ ក្រោយពេលដាំ (យ៉ាងយូរ ៧ថ្ងៃបន្ទាប់ពីដាំ) ដើម្បីការពារសត្វល្អិតចង្រៃបំផ្លាញដំណាំ  ដូចជាពពួកសត្វល្អិតជញ្ជក់ (មានដូចជា រុយស ចៃ ទ្រីប..ជាដើម)



## ៣.ដាំសណ្តែកគួរដោយដាំគ្រាប់ផ្ទាល់

ក្នុងករណីដីមានជីជាតិ ងាយឲ្យគ្រាប់សណ្តែកដុះបានស្រួល កសិករអាចដាំគ្រាប់ ផ្ទាល់លើរង តែម្តង។ ការដាំគ្រាប់ផ្ទាល់ ជួយយើងមិនចាំបាច់ចំណាយថវិកាសំរាប់ទិញថាសបណ្តុះ និង សំភារៈបណ្តុះកូន ផ្សេងទៀត។



១. រៀបចំរង ដាក់ជីទ្រាប់បាត និង គ្របរង ទើបចោះរណ្តៅដាំ



២. បញ្ចូលទឹកតាមចន្លោះរង មុនដាក់ដាំ ដើម្បីឲ្យដីបានសើមគ្រប់កន្លែង និងជៀងវាងកំដៅឆ្លុលពីប្លាស្ទិចធ្វើឲ្យខ្លោចកូនដំណាំ ដែលទើបដុះ



៣. ដាក់ថ្នាំពុលកសិកម្ម ដាយណូតឺហ្វូយរ៉ាន់(Dinotefuran) មុនពេលដាំ ចំនួន ២ក្រាម ក្នុង ១ រណ្តៅ ដើម្បីការការពារសត្វល្អិតបំផ្លាញដំណាំ ដូចជា ពពួកសត្វជញ្ជក់ (រុយស ចៃ ទ្រីប..)



៤.១ យើងអាចដាំគ្រាប់សណ្តែកស្ងួត(មិនចាំបាច់ផ្អាប់គ្រាប់) ក៏បាន ដោយដាក់២គ្រាប់ ក្នុង១ រណ្តៅ



៤.២ តែកសិករ ក៏អាចយកគ្រាប់ ទៅផ្អាប់ឲ្យដុះពន្លកសិន ទើបដាំក៏បាន ដោយដាក់ ២គ្រាប់ ក្នុង១ រណ្តៅ

## ៤. ការថែទាំ

### ៤.១ ការដាក់ជីគីមីបំប៉ន

ត្រូវដាក់ជីគីមី និង ស្រោចទឹកឲ្យទៀងទាត់ ទើបផ្តល់ផ្លែផ្កាបានច្រើន ។ ពេលវេលា និង បរិមាណជីត្រូវដាក់ អាស្រ័យទៅតាមប្រភេទដី។ ដាក់ជីបំប៉នឱ្យទៀទាត់រៀងរាល់ ៧ ថ្ងៃម្តង បន្ទាប់ពីដាំកូនបន្លែហើយ ។ ចំពោះដីខ្សាច់ត្រូវដាក់ជីឱ្យញឹកញាប់ តែក្នុងបរិមាណតិចជាង ដីមានល្បាយច្រើនជាងខ្សាច់។

**បរិមាណ និង ពេលវេលាដាក់ជី សំរាប់ដំណាំសណ្តែកក្អួរ**

| ពេលវេលាដាក់ជី | ប្រភេទជី | បរិមាណជី | កន្លែងដាក់ជី |
|---|---|---|---|
| មុនពេលដាំ ១៥ថ្ងៃ | ជីសរីរាង្គ (លាមកសត្វ ដែលពុកផុយ ឬ កំប៉ុស្តិ៍) | ១-២ គីឡូក្រាម ក្នុង ១ ម៉ែត្រការ៉េ | កប់ជីកណ្តាលរង (ពេលរៀបចំរងដាក់គម្របរង) |
| មុនដាំពី៥ ទៅ ៧ថ្ងៃ (បន្ទាប់ពីចោះរង) | ជី ២០-២០-១៥ | ៥ក្រាម (កន្លះស្លាបព្រាបាយ) ក្នុង ១គុម្ព | បុកកប់កណ្តាលរណ្តៅ (មុនដាំ ពី៥ ទៅ ៧ ថ្ងៃ) |
| ក្រោយពីដាំ ៧ថ្ងៃ | ជី ២០-២០-១៥ និង ជី ៤៦-០-០ | ៥ ក្រាម ក្នុង ១គុម្ព ៥ ក្រាម ក្នុង ១គុម្ព | កប់ជី ១០ សង់ទីម៉ែត្រ ពីគល់ដំណាំ (២ រន្ធ សងខាងគុម្ព) |
| ក្រោយពីដាំ ១៤ថ្ងៃ | ជី ២០-២០-១៥ និង ជី ៤៦-០-០ | ៥ ក្រាម ក្នុង ១គុម្ព ៥ ក្រាម ក្នុង ១គុម្ព | កប់ជី ១០ សង់ទីម៉ែត្រ ពីគល់ដំណាំ (២ រន្ធ សងខាងគុម្ព) |
| ក្រោយពីដាំ ២១ថ្ងៃ | ជី ២០-២០-១៥ និង ជី ១៦-២០-០ | ៥ ក្រាម ក្នុង ១គុម្ព ៥ ក្រាម ក្នុង ១គុម្ព | កប់ជី ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ ពីគល់ដំណាំ (១ រន្ធ ចន្លោះពីរគុម្ព) |
| ក្រោយពីដាំ ២៨ថ្ងៃ | ជី ២០-២០-១៥ និង ជី ១៦-២០-០ | ៥ ក្រាម ក្នុង ១គុម្ព ៥ ក្រាម ក្នុង ១គុម្ព | កប់ជី ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ ពីគល់ដំណាំ (១ រន្ធ ចន្លោះពីរគុម្ព) |
| ក្រោយពីដាំ ៣៥ថ្ងៃ | ជី ២០-២០-១៥ និង ជី ០-០-៦០ | ៥ ក្រាម ក្នុង ១គុម្ព ៥ ក្រាម ក្នុង ១គុម្ព | កប់ជី ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ ពីគល់ដំណាំ (១ រន្ធ ចន្លោះពីរគុម្ព) |
| ក្រោយពីដាំ ៤២ថ្ងៃ | ជី ២០-២០-១៥ និង ជី ០-០-៦០ | ៥ ក្រាម ក្នុង ១គុម្ព ៥ ក្រាម ក្នុង ១គុម្ព | កប់ជី ២៥ សង់ទីម៉ែត្រ ពីគល់ដំណាំ (១ រន្ធ ចន្លោះពីរគុម្ព) |
| ក្រោយពីដាំ ៤៩ថ្ងៃ | ជី ២០-២០-១៥ និង ជី ១៦-២០-០ | ៥ ក្រាម ក្នុង ១គុម្ព ៥ ក្រាម ក្នុង ១គុម្ព | កប់ជី ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ ពីគល់ដំណាំ (១ រន្ធ ចន្លោះពីរគុម្ព) |
| ក្រោយពីដាំ ៥៦ថ្ងៃ | ជី ២០-២០-១៥ និង ជី ០-០-៦០ | ៥ ក្រាម ក្នុង ១គុម្ព ៥ ក្រាម ក្នុង ១គុម្ព | កប់ជី ២៥ សង់ទីម៉ែត្រ ពីគល់ដំណាំ (១ រន្ធ ចន្លោះពីរគុម្ព) |
| ក្រោយពីដាំ ៦៣ថ្ងៃ | ជី ២០-២០-១៥ និង ជី ១៦-២០-០ | ៥ ក្រាម ក្នុង ១គុម្ព ៥ ក្រាម ក្នុង ១គុម្ព | កប់ជី ២៥ សង់ទីម៉ែត្រ ពីគល់ដំណាំ (១ រន្ធ ចន្លោះពីរគុម្ព) |
| ចំណាំ៖ ការដាក់ជីរហូតដល់ប្រមូលផលអស់។ ការដាក់ជីវាអាចប្រែប្រួលបរិមាណ ឬ ប្រភេទជីគឺអាស្រ័យទៅលើសុខភាពដំណាំ | | | |

**ក. ទីតាំងដាក់ជីបំប៉ន**

- រងគ្របប្លាស្ទិច ឬ គ្របចំបើង ត្រូវយកឈើបុករណ្តៅសងខាងគុម្ព ទើបដាក់ជី
- ដាំកូនបន្លែបានរយៈពេល ១៤ថ្ងៃ ត្រូវដាក់ជីចំងាយ ១០សង់ទីម៉ែត្រ (១តឹក) ពីគល់
- ដាំកូនបានរយៈពេលពី ២១ថ្ងៃទៅ ត្រូវដាក់ជីចំងាយពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ ពីគល់ដំណាំ (គឺថា ១ រន្ធ ចន្លោះពីរគុម្ព)



**ចំណាំ:**

- ស្រោចជីបំប៉នស្លឹក បន្ទាប់ពីដាំកូនបាន៧ថ្ងៃ រហូតដល់ចាប់ផ្តើមចេញផ្កាដំបូង។ ស្រោចរៀងរាល់ ៧ថ្ងៃម្តង។
- បាញ់ជីបំប៉នផ្លែផ្កា បន្ទាប់ពីសណ្តែកកួរ ចាប់ផ្តើមចេញផ្កាដំបូង រៀងរាល់៧ថ្ងៃម្តង
- បរិមាណជីក្នុងតារាងខាងលើនេះ គឺអាស្រ័យទៅតាមស្ថានភាពលូតលាស់ដំណាំ។

**ខ. ពេលវេលាដាក់ជីបំប៉ន**

- ដាក់ជីបំប៉នឱ្យទៀងទាត់បន្លោះពី៧ ទៅ១៥ ថ្ងៃម្តង បន្ទាប់ពីដាំកូនបន្លែហើយ គឺអាស្រ័យតាមប្រភេទដី។ ចំពោះដីខ្សាច់ ត្រូវដាក់ជីឱ្យបានញឹកញាប់តែក្នុងបរិមាណតិចជាង ដីមានល្បាយច្រើនជាងខ្សាច់។
- មិនត្រូវដាក់ជីនៅពេលថ្ងៃក្តៅ ដើម្បីជៀសវាងការប៉ះពន្លឺថ្ងៃក្តៅខ្លាំងធ្វើឱ្យជីភាយ ហើយឆួលខ្លោចស្លឹក ដើម
- ត្រូវស្រោចទឹកភ្លាម បន្ទាប់ពីដាក់ជីហើយ។

**៤.២ ការស្រោចទឹក**

- ត្រូវស្រោចទឹកនៅពេលព្រឹក តាមចន្លោះរង។ បើស្រោចទឹកពេលថ្ងៃត្រង់ ឬ ពេលល្ងាច (ដីសើមនៅពេលយប់) អាចធ្វើឲ្យសណ្តែកមានបញ្ហា ដូចជា រលួយ ឬ រលាកដើម។




- ស្រោចទឹកឲ្យបានទៀងទាត់ មិនត្រូវឲ្យដីស្ងួតពេក ជាពិសេស បន្ទាប់ពីដាំកូនហើយ ឬគ្រាប់ដុះហើយ។ ពីព្រោះកូនដំណាំត្រូវការទឹក ជី សំរាប់ដុះលូតលាស់ ឫស ដើម ស្លឹក ផ្កា ផ្លែ។
- បើពិនិត្យឃើញនៅក្បែគល់ស្ងួត (*មិនអាចលុញជាដុំមូលបាន*) ត្រូវស្រោចទឹកបន្ថែម ។ បើដីនៅក្បែរគល់សណ្តែកសើមខ្លាំង (*ច្របាច់ដីមានទឹកហៀរតាមម្រាមដៃ*) មិនត្រូវដាក់ទឹកបន្ថែមទេ។ ទឹកដក់ច្រើនពេកធ្វើឲ្យសណ្តែករលួយឫស ឬ ងាប់ដើមបាន។

**៤.៣ ប្រភេទទ្រើង**

យើងអាចធ្វើទ្រើងសណ្តែកតាមរបៀបផ្សេងៗគ្នា គឺយើងអាចចងខ្សែធ្មុំខាងចុងផ្នែកខាងលើ ប្រើសំណាញ់ទ្រើង ឬ ប្រើកូនឈើ ឬ ឬស្សី។ កសិករ ត្រូវជ្រើសរើសប្រភេទទ្រើងណា ដែលរឹងមាំ។



ជាការប្រសើរ ប្រើខ្សែនៅរដូវដែលមិន

## ៤.៤ ការធ្វើស្មៅ

ត្រូវជំរះស្មៅឲ្យបានស្អាត ទោះបីជារងគ្របចំបើង ឬ គ្របប្លាស្ទិច ក៏ដោយ។ ក្រៅពីដណ្តើមដីពីដំណាំ ស្មៅដុះនៅតាមចន្លោះរង ឬ នៅក្នុងចំការ វាជាជំរកសត្វល្អិតចង្រៃបំផ្លាញ និង ជាភ្នាក់ងារចម្លងជម្ងឺដល់ដំណាំ។

# ៥. ជម្ងឺ និង សត្វល្អិតចង្រៃ

## ៥.១ ទ្រីប (Thrips)

វាបង្កឲ្យផ្កាប្រែពណ៌ត្នោត ក្លាយជាស្ងួត ហើយរហ័សជ្រុះ។ ក្បូរសណ្តែក ត្រួយ និងស្លឹកចាប់ផ្តើមរួញខូច។ ទ្រីប ជាភ្នាក់ងារចម្លងជម្ងឺវីរ៉ុស ធ្វើឲ្យដើមលូតលាស់មិនបានល្អ ធ្វើឱ្យទិន្នផលទាប។

**វិធានការពារ**

- ជៀសវាងដាំសណ្តែកក្បូរ ដដែលៗក្នុងចំការតែមួយ
- ប្រើប្លាស្ទិចគ្របដី(ក្រមរង) នៅពេលដាំ
- ប្រើអន្ទាក់ពណ៌ខៀវជុំវិញចំការ ចន្លោះពីគ្នា ពី៧ ទៅ ១០ ម៉ែត្រ ។



ទ្រីប បំផ្លាញផ្កាសណ្តែក បង្កឲ្យផ្កាជ្រុះ

**របៀបធ្វើអន្ទាក់ចាប់សត្វល្អិតចង្រៃទ្រីប**




ការស្អិតចាប់សត្វល្អិត | លាបការស្អិតពីលើអន្ទាក់ប្លាស្ទិចពណ៌ខៀវ | ដាក់អន្ទាក់ចន្លោះពីគ្នា ពី៧ទៅ១០ម៉ែត្រ

**វិធានការកំចាត់**

កសិករអាចជ្រើសរើសវិធីសាស្ត្រចុងក្រោយសំរាប់កំចាត់ទ្រីប ដោយជ្រើសរើសយកថ្នាំខាងក្រោមណាមួយដែលមាននៅទីផ្សារ ឬ ថ្នាំដែលអនុញ្ញាតិឱ្យប្រើមានប្រសិទ្ធភាពផ្សេងទៀត សំរាប់ប្រើបាញ់ឆ្លាស់គ្នា។

- អ៊ីមីដាក្លូព្រីដ (Imidacloprid)
- ធ្យាមេថូសាន់(Thiamethoxan)
- អាបាមិចទីន (Abermectin)
- ហ្វីព្រ្ហូនីល (Fipronil)

**៥.២. ចៃ (Aphid)**

វាបំផ្លាញដំណាំគ្រប់ប្រភេទ។ គេអាចសំគាល់ចំការបន្លែមានចៃបាន ដោយសារមានស្រមោចជាច្រើនប្រភេទវារ ឬ តោងឡើងលើដំណាំ។ រយៈពេល ពី ៣ ទៅ៤ថ្ងៃ ធ្វើឱ្យស្លឹកដំណាំរួញ ហើយកោងចុះក្រោម ធ្វើឱ្យការលូតលាស់ យឺត ។ ចៃនេះ ជាអ្នកចម្លងជម្ងឺវីរ៉ុស ទៅដំណាំ។



**វិធីការពារ និង កំចាត់**

- បេះសំបុកចៃដោយដៃ
- ប្រើប្លាស្ទិចគ្របដីដាំដំណាំ
- ប្រើអន្ទាក់ស្អិត ចង់ពណ៌លឿង

**របៀបធ្វើអន្ទាក់ចាប់ ចៃ** Aphid




ការស្អិតចាប់ សត្វល្អិត     លាបការស្អិតពីលើអន្ទាក់ប្លាស្ទិចពណ៌លឿង     ដាក់អន្ទាក់ចន្លោះពី ៧ទៅ ១០ម៉ែត្រ

- ប្រើថ្នាំពុលកសិកម្មទ្រាប់បាតរណ្តៅនៅពេលមុននឹងដាំ ដោយប្រើថ្នាំ ដាយណូតឺហ្វូយ៉ាន់ (Dinotefuran) ចំនួន ២ក្រាម ក្នុង ១ រណ្តៅ។ យើងអាចដាក់មុន ឬ ក្រោយពេលដាំ (យ៉ាងយូរ៧ថ្ងៃបន្ទាប់ពីដាំ) ដើម្បីការពារសត្វល្អិតចង្រៃបំផ្លាញដំណាំ ដូចជា ពពួកសត្វល្អិតជញ្ជក់ រុយស និងសត្វល្អិតជញ្ជក់ផ្សេងៗទៀត។ កសិករអាចជ្រើសរើសវិធីសាស្ត្រចុងក្រោយសំរាប់កំចាត់ចៃនេះ ដោយជ្រើសរើសយកថ្នាំខាងក្រោមណាមួយដែលមាននៅទីផ្សារ សំរាប់ប្រើបាញ់ឆ្លាស់គ្នា។
  - ថ្នាំ អ៊ីមីដាក្លូព្រីដ (Imidacloprid) ថ្នាំ ធ្យាមេថូសាន់(Thiamethoxan) ថ្នាំអាបាមិចទីន (Abermectin)
  - ថ្នាំ ហ្វីព្រ្ហូនីល (Fipronil) ថ្នាំ មេតូមីល (Methomyl) ។

**ចំណាំៈ**

- មិនត្រូវយកថ្នាំពុលកសិកម្មលាយចូលគ្នាច្រើនមុខសំរាប់បាញ់ទេ (ថ្នាំអាចមានប្រតិកម្មជាមួយគ្នាបណ្តាលឲ្យពុំមានប្រសិទ្ធិភាព)
- ត្រូវជ្រើសរើសយកក្បាលបាញ់ទុយយោ មានលក្ខណៈសាចល្អ ទើបថ្នាំនៅជាប់នឹងដើមស្លឹកបន្លែ
- ត្រូវប្រើទឹកស្អិតលាយជាមួយថ្នាំសំរាប់បាញ់
- ត្រូវបាញ់នៅតាមត្រួយស្លឹកដើមឱ្យសព្វ ហើយបាញ់ថ្នាំ នៅពេលល្ងាច

### ៥.៣. ដង្កូវស៊ីរុយផ្លែ

ដង្កូវនេះចូលចិត្តស៊ីផ្កា ធ្វើឲ្យផ្កាមិនលូតលាស់ មិនចេញផ្លែ។ តែបើវាស៊ីក្នុងក្បូរសណ្តែក ធ្វើឲ្យក្បូរសណ្តែក ស្អុយដាច់រឆេតរឆូត។ គេអាចកំចាត់ដង្កូវនេះបាន ដោយៈ



- បេះផ្លែដែលមានដង្កូវស៊ីយកកប់ចោល (បើមិនបេះចេញពីដើម ឬ មិនកប់ផ្លែទេ ដង្កូវដែលញាស់ចេញពីផ្លែនេះ នឹងធំ ហើយក្លាយជាមេអំបៅ ហើយពងដាក់ សណ្តែក ញាស់ជាកូនដង្កូវ រួចបំផ្លាញ បន្ត កាន់តែច្រើនជាងមុនទៀត។
- ប្រមូលកាកសំណល់ដែលសេសសល់ពីការប្រមូលផលយកដុតចោល។
- ប្រើថ្នាំកសិកម្មៈ
  វិធីសាស្រ្តចុងក្រោយសំរាប់កំចាត់ដង្កូវអាចជ្រើសរើសយកថ្នាំខាងក្រោមណាមួយដែលមាននៅទីផ្សារសំរាប់ប្រើបាញ់ឆ្លាស់គ្នាដូចជា ថ្នាំអាបាមិចទីន (Abermectin) ថ្នាំស៊ីភើមេទ្រីន (Cypermethrin) ជាដើម។

## ៦. ការប្រមូលផល

- ទំហំផ្លែសណ្តែកក្បូរ បេះទៅតាមតំរូវការទីផ្សារ
- ត្រូវបេះផ្លែនៅពេលព្រឹក ដោយប្រើកន្ត្រៃកាត់ទង
- បេះផ្លែដាក់ក្នុងសម្ភារៈដែលមានផ្ទៃរលោង ដើម្បីជៀសវាងការកកិត និងជាំផ្លែ
- ចំណាត់ថ្នាក់គុណភាពសណ្តែកក្បូរ លេខ ១, ២, ៣
- ច្រកថង់ដែលមានបរិមាណសមស្របមានគុណភាពស្អិតទន់
- ថង់ត្រូវចោះរន្ធតូចៗ ដើម្បីឲ្យមានខ្យល់ចេញចូល កុំឱ្យក្តៅស្អោក
- ជៀសវាងច្រកបន្លែច្រើនហួសបរិមាណ។ ហាមប្រើសម្ភារៈគ្មានខ្យល់ចេញចូល ព្រោះវាធ្វើឲ្យបន្លែឆាប់ខូចគុណភាព (ទន់ ប្រែពណ៌លឿង និង ងាយរលួយ)។



## ៧. ការកត់ត្រាចំណូលចំណាយផលិតកម្ម និង វិភាគសេដ្ឋកិច្ច

### ៧.១. ការកត់ត្រាចំណាយចំណូលផលិតកម្ម

ការកត់ត្រាទុកនូវតួរលេខន៍ចំណាយចំណូល មានសារៈសំខាន់ណាស់ ។ មាន ហេតុផលជាច្រើន ដែលគេចាំបាច់ត្រូវកត់ត្រាជាប្រចាំ ពីចំណាយចំណូលផលិតកម្ម ។ ហេតុផលចំបងមួយចំនួន មានដូចជា៖

ប្រសិនបើគ្មានការកត់ត្រាពីអ្វីដែលត្រូវបានចំណាយ ហើយអ្វីដែលបានចំណូលនោះទេ យើងនឹងមិនអាចដឹងបានទេ ថាតើ មុខជំនួញ (ដូចជា *ការដាំបន្លែ*) របស់យើង ខាត ឬ ចំណេញ? ចូរចងចាំថា *ការទទួលបានប្រាក់ចំណូលរាល់ថ្ងៃ មិនមានន័យថា យើងបានទទួលប្រាក់ចំណេញនោះទេ* ។

ប្រសិនបើយើងដឹងច្បាស់ពីមុខចំណាយ និង មុខចំណូលច្បាស់លាស់ យើងអាចរិះរកវិធីដើម្បី គ្រប់គ្រងជំនួញឲ្យបានកាន់តែល្អ កាន់តែបានចំណេញច្រើន។

កំណត់ត្រាអាចត្រូវប្រើប្រាស់សម្រាប់ធ្វើផែនការចំណាយនៅពេលអនាគត ពីព្រោះយើងអាចដឹងពីតំលៃ និងធនធានដែលត្រូវចំណាយ ។

គោលដៅចំបងនៃធ្វើជំនួញ ឬ ផលិតកម្មអ្វីមួយ គឺរកបានចំណេញ និង កាន់តែចំណេញច្រើន ។ ប្រាក់ចំណេញ ជា <u>ផលសង (ឬ ភាពខុសគ្នាជាវិជ្ជមាន)</u> រវាង ប្រាក់ចំណូល (បានមកពីការលក់ផលិតផល ឬ សេវាកម្ម) និងប្រាក់ចំណាយទាំងអស់ ។ ចំណាយ អាចបែងចែកជា ២ ប្រភេទ គឺ ៖

(១) <u>ចំណាយថេរ</u> (មិនប្រែប្រួល*) គឺជា ចំណាយមូលធន ដែលប្រើមួយសារមិនខូច ឬ មិនអស់ ដូចជា ដីសំណង់ ឃ្លាំង សម្ភារៈសាងសង់ទ្រើងត្រសក់ ធុងស្រោច ម៉ាស៊ីនបូមទឹក ប្រព័ន្ធស្រោចស្រពដំណក់ទឹក រោងបណ្ដុះផ្សិត ទ្រុងមាន់ គ្រឿងចក្រ...... ដែលមានតំលៃ (ត្រូវកាត់រំលស់) ជាប្រចាំ ទោះជាមានការផលិត ឬក៏ គ្មានការផលិតក៏ដោយ ។ ដោយសារឧបករណ៍ និង សម្ភារៈ ក្នុងមុខចំណាយ*មិនប្រែប្រួល* ទាំងនេះ អាចប្រើបានច្រើនដង (ប្រើម្ដងមិនអស់) ហើយ អាចប្រើនៅក្នុងផលិតកម្ម សារក្រោយៗ បានទៀតនោះ គេត្រូវគិតរំលស់វា ជាច្រើនសារ/ដង ។ ការកំណត់ចំនួនសាររំលស់ថ្លៃឧបករណ៍ និង សម្ភារៈ ក្នុងប្រភេទចំណាយថេរនេះ អាចគិតបានច្រើនបែប ដូចជា តាមចំនួនសារ (ដង) ផលិតកម្ម តាមអាយុកាល (រយៈពេល) អាចនៅប្រើបានរបស់វា ...... ។

* *មិនប្រែប្រួល* បានន័យថា៖ នៅពេលទិញ ឬ សាងសងហើយ (គឺថា បានចំណាយហើយ) ទោះបីបានប្រើ ឬ មិនបានប្រើក្ដី សម្រាប់ការផលិតទំនិញ(ផលិតផល)អ្វីមួយ ក៏ដោយ ក៏គុណភាព (គឺថា វាក្លាយបន្ដិចម្ដងៗ ទៅជារបស់ចាស់ សឹករេចរឹល...... ) ហើយ តំលៃរបស់វា នឹងត្រូវធ្លាក់ចុះបន្ដិចម្ដងៗ ទៅតាមនោះដែរ។

(២) ចំណាយប្រែប្រួល គឺជាប្រភេទចំណាយជាក់ស្តែងសម្រាប់ការផលិតមុខផលិតផល ឬ សេវាកម្មអ្វីមួយ។ ការចំណាយប្រភេទនេះ រួមមាន វត្ថុធាតុដើម ដូចជា គ្រាប់ពូជ ជី ថ្នាំ កំបោរស ការរៀបចំដី ថ្លៃបូមទឹកស្រោចស្រព ពលកម្ម...... ដែលត្រូវការ ចាំបាច់សម្រាប់ផលិតរបស់ ឬ ផលិតផលអ្វីមួយ (ដូចជា បន្លែ ផ្សិតចំបើង ពោត សណ្តែក មាន់ ជ្រូក......) ។

ដើម្បីឲ្យដឹងច្បាស់ ថាតើគោលដៅជោគជ័យជំនួញ សម្រេចបានត្រឹមណានោះ គេត្រូវការព័ត៌មានជាចាំបាច់ ដែលមិនអាចរកបាន ក្រៅពីការកត់ត្រាជាប្រចាំ និង បានត្រឹមត្រូវរបស់យើង នោះឡើយ ។ ការកត់ត្រា អាចផ្តោតលើ ការប្រមូលព័ត៌មានចាំបាច់ សម្រាប់វិភាគចំណាយ និង ចំណេញ និង តម្រង់ទិសមុខរបរ ឬ ផលិតកម្ម តាមពេលវេលា ឲ្យចំឆ្លើយតបតាមតម្រូវការទីផ្សារ និង ទៅអនាគតខាងមុខ ។ ខាងក្រោមនេះ ជាទម្រង់កត់ត្រាគំរូសាមញ្ញមួយ ដែលកសិករ (*អ្នកដាំបន្លែ*) អាចប្រើសម្រាប់កត់ត្រាចំណាយ ចំណូលរបស់ខ្លួន ។

ក. តារាងចំណាយ

| ឈ្មោះផលិតកម្មៈ..........................................<br>ថ្ងៃចាប់ផ្តើមផលិតកម្មៈ...................................... | | | ថ្ងៃបញ្ចប់ផលិតកម្មៈ........................... | | |
|---|---|---|---|---|---|
| **លរ** | **មុខចំណាយ** | **ឯកតា** | **ចំនួន** | **តំលៃ ១ឯកតា** | **ទឹកប្រាក់សរុប** |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |

ខ. តារាងចំណូល

| ឈ្មោះផលិតកម្មៈ..........................................<br>ថ្ងៃចាប់ផ្តើមផលិតកម្មៈ...................................... | | | ថ្ងៃបញ្ចប់ផលិតកម្មៈ........................... | | |
|---|---|---|---|---|---|
| **លរ** | **មុខចំណូល** | **ឯកតា** | **ចំនួន** | **តំលៃ ១ឯកតា** | **ទឹកប្រាក់សរុប** |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |

## ៧.២. តារាងគំរូ សម្រាប់វិភាគចំណាយចំណូលផលិតកម្មដំណាំបន្លែ

| | |
|---|---|
| កសិករ: | នៅ: |
| ដំណាំ: *(ត្រសក់ទ្រើង)* | ពូជ: |
| ថ្ងៃចាប់ផ្តើម: | ថ្ងៃប្រមូលផល: |
| ផ្ទៃដី: (ម៉ែត្រការ៉េ) | ចំនួនដើម: |

| បរិយាយ | ឯកត្តា | ចំនួនឯកត្តា | តម្លៃ ១ ឯកត្តា | ទឹកប្រាក់សរុប | ចំនួនសាររំលស់ | ប្រាក់សរុប ១ រដូវ (រៀល) |
|---|---|---|---|---|---|---|
| **១-ចំណូល** | | | | | | |
| ក-ប្រាក់ចំណូលដែលលក់បាន | គីឡូក្រាម | | | | | |
| ខ-មិនមែនជាប្រាក់ចំណូល(ហូប) | គីឡូក្រាម | | | | | |
| ចំណូលសរុប | | **A** | | | | |
| **២ក-ចំណាយប្រែប្រួល** | | | | | | |
| កម្លាំងពលកម្ម (សរុប ១វគ្គដាំដុះ) | ថ្ងៃ (ឬ ម៉ោង) | | | | | |
| គ្រាប់ពូជ | កញ្ចប់ | | | | | |
| ជីគីមី | សរុបរួម | | | | | |
| ជីធម្មជាតិ | គីឡូក្រាម | | | | | |
| ជីទឹកជំនួយលូតលាស់ | កញ្ចប់ | | | | | |
| ថ្នាំកំចាត់ជម្ងឺផ្សិត | សរុបរួម | | | | | |
| ថ្នាំកំចាត់សត្វល្អិត | សរុបរួម | | | | | |
| ម៉ាស៊ីនបូមទឹក | ប្រេងដែលប្រើ | | | | | |
| អន្ទាក់ចាប់សត្វល្អិត | ឈុត | | | | | |
| សរុបចំណាយ ប្រែប្រួល (TVC) | | | | | | |
| *៣ក-ចំណេញ ធៀប ចំណាយប្រែប្រួល* | | | | | | |
| **២ខ-ចំណាយមិនប្រែប្រួល/ថេរ( ត្រូវរំលស់ )** | | | | | | |
| កៅស៊ូប្លាស្ទិចគ្របដីរង | ម៉ែត្រ | | | | | |
| បង្គោលចំណារ/ទ្រើង | ដើម | | | | | |
| ខ្សែទ្រើង | គីឡូក្រាម | | | | | |
| ថាសបណ្តុះកូន | ថាស | | | | | |
| សំណាញ់ទ្រើង | ដុំ | | | | | |
| សរុបចំណាយមិនប្រែប្រួល ថេរ (TFC) | | | | | | |
| **២គ-ចំណាយសរុប** (TC = TVC+TFC ) | | | | | | **TC** |
| *៣ខ-ចំណេញ ធៀប ចំណាយសរុប* (TC) | | | | | | B |
| | | | | | | |
| **ថ្លៃដើម ១ គីឡូ (រៀល)** | | | | | | **= TC / A** |
| **ចំណេញ ១ គីឡូ (រៀល)** | | | | | | **= B / A** |

